💡 *Tips of the Week*




# (Believer in Islam, Part II)

(Believer in Islam, Part II)

~muʾmin នឹងត្រូវបានគេប្រមូលផ្តុំនៅថ្ងៃគេធ្វើឲ្យរស់ឡើងវិញដោយពួកគេនឹងខ្វាយខ្វល់អំពីវា និងចងចាំអំពីវា ។
(Sahih Muslim 193 b)

~muʾmin នឹងឃើញអល់ឡោះជាម្ចាស់នៅថ្ងៃបរលោក
(Sahih Muslim 180)

~muʾmin អាចនឹងមានជំនឿនៅពេលល្ងាច និងអជំនឿវិញនៅពេលព្រឹក
(Sahih Muslim 118)

~mu˒min អាចនឹងលក់ជំនឿរបស់ពួកគេដើម្បីរបស់របរ លោកិយនេះ

~mu˒min ដែល Salih (មានជំនឿយ៉ាងស៊ុប) គឺជាមិត្តភក្តិ របស់រ៉សូលុលឡោះ ﷺ ។
(Sahih Muslim 215)

~mu˒min ដែលខ្សោយការធ្វើល្អចំពោះពួកគេ គឺត្រូវបានគេយកចិត្តទុកដាក់
(Sahih Muslim 150 a)

~mu˒min ដែលមានជំនឿមុនការកើតឡើង 3 ប្រការ គឺគោលជំនឿរបស់ពួកគេនឹងមានប្រយោជន៍ និងផ្តល់ផលល្អ សំរាប់ពួកគេ ។ 3 ប្រការនោះ មានដូចជា៖

1.ព្រះអាទិត្យរះពីកន្លែងដែលវាលិច
2.ការចេញមកនៃ Dajjal
3.ការចេញមកនៃសត្វកាចសាហាវធំៗ (Beast)
(Sahih Muslim 158)

~mu˒min ដែលមានជំនឿហើយជំនឿនោះ គឺនាំទៅក្លាយជាផលបុណ្យដ៏ល្អក្នុងចំណោមអំពើល្អទាំងឡាយនោះ គឺពួកគេបានជឿទៅលើ អល់ឡោះជាម្ចាស់ និងអ្នកនាំសាររបស់ទ្រង់ ។
(Sahih Muslim 83)

~mu˒min ដែលជឿគ្រប់គម្ពីរទាំងឡាយដែលអល់ឡោះបានស្រឡាញ់អ្នក មិនមែនជាពួកគេ ឬអ្នកមិនមែនអីស្លាម តែពួកទាំងនោះមិនបានស្រឡាញ់ពួកអ្នក mu˒min ឡើយ ។ នៅពេលពួកគេបានជួបពួកអ្នកពួកគេបាននិយាយថា៖ ពួកយើងបាន ជឿហើយ តែនៅពេលពួកគេនៅឆ្ងាយ(ពីពួកអ្នក) ពួកគេបានខាំ ចុងម្រាមដៃរបស់ពួកគេ ដោយមានកំហឹងចំពោះពួកអ្នក។
(al-Quran 3:119)

~muʾmin ដែលក្លាហានពួកគេនឹងទៅសើបមើល Gog and Magog នៅថ្ងៃនោះគ្មានអ្នកណាហ៊ាននឹងចុះទៅនោះឡើយ ។

~muʾmin គឺជាជនដែលមានជំនឿទៅលើសញ្ញាភស្តុតាង របស់ណាប៊ីដែលអល់ឡោះបានផ្តល់ឲ្យពួកគេ ។ កាតព្វកិច្ច មានជំនឿអំពីសារព្រះដែលបានបញ្ចុះមកសំរាប់រ៉ស៊ូលុលឡោះ ﷺ គឺសំរាប់មនុស្សទាំងឡាយ ហើយវាបញ្ចុះមក ដើម្បីបដិសេធចោលរាល់សាសនាឯទៀតៗ ។

(Sahih Muslim 152)

~muʾmin ជាជនស្រឡាញ់ពេញចិត្តនឹង ʾAli ibn Abi Talib

(Sahih Muslim 78)

~muʾmin ត្រូវបានអនុញ្ញាតិឲ្យលាក់បាំងអំពីគោលជំនឿរបស់ពួកគេក្នុងករណីដែលមានការភ័យខ្លាចអំពីអ្វីមួយ

(Sahih Muslim 149)

~muʾmin បានព្រួយបារម្ភអំពីផលបុណ្យរបស់ពួកគេអាចនឹងបាត់បង់

(Sahih Muslim 119 a)

~muʾmin ស្ត្រីត្រូវបានអីស្លាមលើកតំកើង និងការពារ ។ ជនណាដែលបានចោទប្រកាន់ពួកនាងខណៈមិនពិត និងជាមនុស្សស្អាតស្អំនឹងត្រូវបានគេដាក់ទោស ។

(Sahih Muslim 89)

~muʾmin ចំពោះអល់ឡោះនិងថ្ងៃបរលោក មិនដែលមាន ការខឹងសម្បារនឹងពួក Ansar ឡើយ ។

(Sahih Muslim 76)

~muʾmin គឺក្នុងចំណោមប្រជាជន Hijaz

(Sahih Muslim 53)

~mu᾽min គឺ Yemenites ។ ពួកគេមានលក្ខណះសម្បត្តិដូចជា៖

1.មានចិត្តទន់ភ្លន់

2.មានជំនឿ

3.មានការយល់ដឹងជ្រៅជ្រះអំពីគោលជំនឿ

4.មានភាពឆ្លាតវៃ

(Sahih Muslim 52 a)

~mu᾽min ជំនាន់មុនត្រូវបានគេសំលាប់ដោយសារពួកគេ គ្រាន់តែជឿនឹងអល់ឡោះជាម្ចាស់ ។

~mu᾽min ត្រូវបានគេហាមឃាត់ឲ្យជៀសវាងពីអំពើបាបកម្មធំៗ ។ បើធ្វើដូចនេះអល់ឡោះនឹងលុបបំបាត់នូវកំហុសតូចៗហើយនឹងបញ្ចូលទៅកន្លែងមួយដ៏ឧត្តុង្គឧត្តម (ឋានសួគ៌)។

(al-Quran 4:31)

~mu᾽min បានក្លាយជាអ្នកប្រឆាំង ឬជនអជំនឿដូច្នេះ
អល់ឡោះមិនអភ័យទោសដល់ពួកគេ និងមិនចង្អុលបង្ហាញ ផ្លូវដល់ពួកគេទេ ដោយសារពួកគេមានជំនឿ បន្ទាប់មកប្រឆាំង បន្ទាប់មកមានជំនឿម្តងទៀត ហើយជាចុងក្រោយប្រឆាំងវិញ ហើយកាន់តែបង្កើនការប្រឆាំងថែមទៀត ។

(al-Quran 4:137)

~mu᾽min និងអ្នកសាងអំពើល្អដែលបានផឹកស្រាមុនពេលបំរាម គឺគ្មានបាបកម្មនោះឡើយសំរាប់ពួកគេ បើសិនជា ពួកគេបានកោតខ្លាចអល់ឡោះ និងមានជំនឿ ហើយ និងប្រឹងប្រែងធ្វើអំពើល្អវិញឡើងវិញ ។

(al-Quran 5:93)

•អ្នកដែលមិនអាចក្លាយជាអ្នក mu՚min

~ជនដែលប្រព្រឹត្តអំពើទាំងនេះនឹងមិនអាចក្លាយជាអ្នក mu՚min បានឡើយលុះត្រាតែបញ្ឈប់វា ៖

1.អ្នកប្រព្រឹត្ត Zina នៅពេលប្រព្រឹត្តវា
2.អ្នកផឹកស្រា នៅពេលប្រព្រឹត្តវា
3.ចោរលួច នៅពេលប្រព្រឹត្តវា
(Sahih al-Bukhari 6810)

~ជនដែលមិនអាចក្លាយជាអ្នក mu՚min បានមាន៖

1.អ្នកសាហាយស្មន់
2.អ្នកផឹកស្រា
3.ចោរលួច

Caption

4.ចោរប្លន់
5.អ្នយកកទ្រព្យសម្បត្តិអ្នកដទៃដោយការបង្ខិតបង្ខំខណៈ ពេលអ្នកអីស្លាមកំពុងមើលវា ។
(Sunan an-Nasa'i 5660)

•លក្ខណះសម្បត្តិរបស់អ្នក mu՚min

»mu՚min មានគុណលក្ខណះមួយចំនួនដូចជា៖

I.mu՚min ស្រឡាញ់អល់ឡោះលើសពីអ្វីៗទាំងអស់
(al-Quran 2:165 , 3:31)

II.mu`min គឺអាចដឹងអំពី Ma`rifat billah (the Substance of God) ដោយការសួរនាំចំពោះអ្នកនាំសារព្រះ
(al-Quran 3:179, 8:2)

III.mu`min គឺមានជំនឿចំពោះអល់ឡោះនិងបណ្តាម៉ាឡាអ៊ីកាត់របស់ទ្រង់ និងបណ្តាគម្ពីររបស់ទ្រង់ ហើយនិងបណ្តាអ្នក នាំសាររបស់ទ្រង់។ (ពួកគេបាននិយាយថា) ពួកយើងមិនបែង ចែកអ្នកនាំសារណាម្នាក់ក្នុងចំណោមអ្នកនាំសារទាំងឡាយរបស់ អល់ឡោះនោះឡើយ។ ហើយពួកគេបានអះអាងថាៈ ពួកយើង  បានឮនិងអនុវត្តតាម(រាល់បទបញ្ជារបស់ទ្រង់)។
(al-Quran 2:285, 4:136)

IV.mu`min ក៏មានដែរក្នុងចំណោមអ្នក Ahl al-Kitāb (the People of the Book)
(al-Quran 3:113-114)

V.mu`min គឺជាអ្នកមានចិត្តភ័យខ្លាចញាប់ញ័រនៅពេលមានគេរំលឹកចំពោះអល់ឡោះ ហើយនៅពេលដែលមានគេសូត្រអាយ៉ាត់ៗរបស់ ទ្រង់ឱ្យពួកគេស្តាប់ វាធ្វើឱ្យពួកគេកាន់តែមានជំនឿថែមទៀត។ ហើយចំពោះម្ចាស់របស់ពួកគេតែមួយគត់ ដែលពួកគេប្រគល់ការ ទុកចិត្ត។
(al-Quran 8:2)

VI.mu`min គឺសឡាតដោយ khusyu` (constantly staring at God)...
(al-Quran 23:1-11)

1.ពិតជាទទួលបានជោគជ័យ

2.ចិត្តមានភាពនឹងនរក្នុងការប្រតិបត្តិសឡាត

3.អ្នកដែលបោះបង់ចោលនូវរាល់ទង្វើដែលគ្មានប្រយោជន៍

4.អ្នកដែលបានបរិច្ចាគហ្សាកាត់

5.អ្នកដែលបានថែរក្សាប្រដាប់ភេទ

6.លើកលែងតែចំពោះភរិយារបស់ពួកគេ និងពួកខ្ញុំបម្រើស្រី ដាច់ថ្លៃ ដែលនៅក្រោមការគ្រប់គ្រងរបស់ពួកគេប៉ុណ្ណោះ។ ហើយ ពិតប្រាកដណាស់ ពួកគេមិនត្រូវបានគេយកទោសពៃរ៍ឡើយ។

7.អ្នកដែលមិនស្វែងរកការត្រេកត្រអាលក្រៅពីប្រពន្ធ និងខ្ញុំបម្រើដាច់ថ្លៃរបស់ពួកគេ

8.អ្នកដែលថែរក្សានូវភាពស្មោះត្រង់និងការ សន្យារបស់ពួកគេ

9.អ្នកដែលថែរក្សាការប្រតិបត្តិសឡាត

10.អ្នកដែលត្រូវទទួលមរតក (ឋានសួគ៌)

11.អ្នកដែលទទួលមរកតឋានសួគ៌ហ្វៀរដោស(ឋាន សួគ៌ដែលមានឋានៈខ្ពង់ខ្ពស់ជាងគេ) ដោយពួកគេស្ថិតនៅក្នុងនោះ ជាអមតៈ

•ដំណាក់កាលនៃគោលជំនឿ

Caption

~Islam មានគុណលក្ខណៈកំរិត 3 ៖

1.Islam
2.Iman
3.Ihsan

~ដំណាក់កាលទី 1 គឺ Islam គឺពួកគេស្ថិតក្នុងការយល់ព្រម និងគោរពបទបញ្ជាចំពោះអល់ឡោះ និងអ្នកនាំសារព្រះ ធ្វើការសឡាត បួស បង់ Zakat និងធ្វើបុណ្យ Hajj ...

~ដំណាក់កាលទី 2 គឺ Iman គឺចិត្តគំនិតមានគោលជំនឿស៊ុជំរៅរឹងមាំចំពោះព្រះ និងសាសនា

~ដំណាក់កាលទី 3 គឺ Ihsan គឺស្ថិតក្នុងដំណាក់កាលចុងក្រោយ ដែលជាកំរិតខ្ពស់ដោយពួកគេមាជំនឿនឹងអល់ឡោះដូចដែលពួកគេបានឃើញអល់ឡោះ ទោះបីពួកគេមិនដែលបានឃើញព្រះក៏ដោយ ។ នៅពេលគោរពសក្ការះ និង ប្រព្រឹត្តអំពើអ្វីមួយពួកគេបានធ្វើហាក់បីដូចជាព្រះកំពុងឃ្លាំមើលពួកគេដូច្នោះឯង ។

•ភាពខុសគ្នារវាង muʾmin និង Muslim

~កំរិតនៃគោលជំនឿនៃសាសនាអីស្លាមមានដំណាក់កាលដំបូងចាប់ផ្តើមពីគោលជំនឿជាអ្នក Muslim រហូតដល់អ្នក muʾmin និងបន្ទាប់មក Ihsan

~muʾmin ជាអ្នកមានជំនឿមុតមាំ និងពិតប្រាកដដែលស្ថិត នៅលើ Muslim

~Muslim ម្នាក់អាចជាអីស្លាម តែមិនទាន់ជា muʾmin បានទេដោយសារយើងអាចមើលឃើញសកម្មភាពរបស់ពួកគេផ្នែកខាងក្រៅដូចជាសឡាត បួស ... តែយើងមិនអាចដឹងពីគោលជំនឿខាងក្នុងចិត្តរបស់ពួកគេនោះឡើយ

سورة الحجرات:14

ពួកអារ៉ាប់ជនបទបាននិយាយថាៈ ពួកយើងមានជំនឿ ហើយ។ ចូរអ្នក(មូហាំម៉ាត់)ពោលថាៈ ពួកអ្នកមិនទាន់មានជំនឿ ឡើយ តែពួកអ្នកត្រូវនិយាយថាៈ ពួកយើងបានចូលសាសនាអ៊ីស្លាម ហើយ ខណៈដែលភាពមានជំនឿមិនទាន់ចូលទៅក្នុងចិត្តរបស់ពួកអ្នកនោះ។ តែប្រសិនបើពួកអ្នកប្រតិបត្តិតាមអល់ឡោះ និងអ្នក នាំសាររបស់ទ្រង់វិញនោះ ទ្រង់នឹងមិនលុបបំបាត់នូវអ្វីដែលជាអំពើ ល្អរបស់ពួកអ្នកឡើយ។ ពិតប្រាកដណាស់ អល់ឡោះមហាអភ័យ-ទោស មហាអាណិតស្រឡាញ់។

~Muslim គេមិនអាចប្រាកដថាជា mu᾿min បានទេតែ Muttaqins ពួកគេអាចជាអ្នក mu᾿min បានព្រោះ ពួកគេជាអ្នកកោតខ្លាចអល់ឡោះនិងអនុវត្តតាមបទបញ្ជាផ្សេងៗ ដែលយើងអាចធ្វើការសំគាល់ពួកគេបាន ។

~Muslim គឺជាអ្នកកាន់សាសនាអីស្លាម ក៏ប៉ុន្តែពួកគេមិនទាន់បានបំពេញ ឬមានជំនឿ Iman គ្រប់លក្ខំណនៅឡើយទេ

~mu᾿min គឺជាអ្នកអីស្លាមដែលបានបំពេញគ្រប់លក្ខំណ្ឌជំនឿ Iman នៅក្នុងចិត្តរបស់ពួកគេផ្ទាល់

~Muhsin គឺជាគុណលក្ខណៈចុងក្រោយនៃអ្នកកាន់សាសនាអីស្លាមដែលអនុវត្ត Ihsaan ហើយ Ihsaan មានន័យថា គឺគោរពសក្ការះព្រះដូចដែលបានឃើញព្រះ ទោះបីជាមិនបានឃើញព្រះក៏ដោយ ។

~Muhsin ពួកគេផ្ទុក ទៅដោយ  Muslim និង mu᾿min

Caption

~Muhsin អាចជា Muslim និង mu᾿min តែ Muslim ឬ mu᾿min មិនអាចជា Muhsin ភ្លាមៗបាននោះទេ ។

•ពួកអ្នកជនបទ និងការចង់ក្លាយជា mu᾿min

قَالَتِ الْأَعْرَابُ آمَنَّا ۖ قُلْ لَمْ تُؤْمِنُوا وَلَٰكِنْ قُولُوا أَسْلَمْنَا وَلَمَّا يَدْخُلِ الْإِيمَانُ فِي قُلُوبِكُمْ ۖ وَإِنْ تُطِيعُوا اللَّهَ وَرَسُولَهُ لَا يَلِتْكُمْ مِنْ أَعْمَالِكُمْ شَيْئًا ۚ إِنَّ اللَّهَ غَفُورٌ رَحِيمٌ
سورة الحجرات:14

ពួកអារ៉ាប់ជនបទបាននិយាយថាៈ ពួកយើងមានជំនឿ ហើយ។ ចូរអ្នក(មូហាំម៉ាត់)ពោលថាៈ ពួកអ្នកមិនទាន់មានជំនឿ ឡើយ តែពួកអ្នកត្រូវនិយាយថាៈ ពួកយើងបានចូល

សាសនាអ៊ីស្លាម ហើយ ខណៈដែលភាពមានជំនឿមិនទាន់ចូលទៅក្នុងចិត្តរបស់ពួកអ្នកនោះ។ តែប្រសិនបើពួកអ្នកប្រតិបត្តិតាមអល់ឡោះ និងអ្នក នាំសាររបស់ទ្រង់វិញនោះ ទ្រង់នឹងមិនលុបបំបាត់នូវអ្វីដែលជាអំពើ ល្អរបស់ពួកអ្នកឡើយ។ ពិតប្រាកដណាស់ អល់ឡោះមហាអភ័យ-ទោស មហាអាណិតស្រឡាញ់។

إِنَّمَا الْمُؤْمِنُونَ الَّذِينَ آمَنُوا بِاللَّهِ وَرَسُولِهِ ثُمَّ لَمْ يَرْتَابُوا وَجَاهَدُوا بِأَمْوَالِهِمْ وَأَنْفُسِهِمْ فِي سَبِيلِ اللَّهِ ۚ أُولَٰئِكَ هُمُ الصَّادِقُونَ
سورة الحجرات:15

តាមពិតបណ្តាអ្នកដែលមានជំនឿគឺអ្នកដែលបានជឿលើ អល់ឡោះ និងអ្នកនាំសាររបស់ទ្រង់ បន្ទាប់មកពួកគេមិនសង្ស័យ ហើយបានតស៊ូក្នុងមាគ៌ារបស់អល់ឡោះ ដោយទ្រព្យសម្បត្តិរបស់ ពួកគេ និងខ្លួនប្រាណរបស់ពួកគេ។ អ្នកទាំងនោះជាអ្នកដែលមាន ជំនឿយ៉ាងពិតប្រាកដ។

يَمُنُّونَ عَلَيْكَ أَنْ أَسْلَمُوا ۖ قُلْ لَا تَمُنُّوا عَلَيَّ إِسْلَامَكُمْ ۖ بَلِ اللَّهُ يَمُنُّ عَلَيْكُمْ أَنْ هَدَاكُمْ لِلْإِيمَانِ إِنْ كُنْتُمْ صَادِقِينَ
سورة الحجرات:17

Caption

ពួកគេចាត់ទុកថា ការចូលសាសនាអ៊ីស្លាមរបស់ពួកគេ ផ្តល់ប្រយោជន៍ដល់អ្នក(មូហាំម៉ាត់)។ ចូរអ្នកពោលថាៈ ពួកអ្នកកុំ ចាត់ទុកការចូលសាសនាអ៊ីស្លាមរបស់ពួកអ្នកផ្តល់ប្រយោជន៍ដល់ខ្ញុំ ឱ្យសោះ។ ផ្ទុយទៅវិញ អល់ឡោះទេដែលប្រទាននៀកម៉ាត់ដល់ ពួកអ្នក ដោយទ្រង់បានចង្អុលបង្ហាញពួកអ្នកទៅរកភាពមានជំនឿ ប្រសិនបើពួកអ្នកជាអ្នកនិយាយពិតនោះ។

•ការបួងសួងសំរាប់អ្នក muʾmin ដែលត្រូវបានបំពាន

"اللَّهُم فأيما مؤمن سببته فاجعل ذلك له قربة إليك يوم القيامة"

Allāhumma fa'ayyumā mu'minin sababtuhu
faj`al dhālika lahu qurbatan ilayka yawma ‘l-qiyāmah.

O Allah, whomever of the believers I have abused, give him the reward of a sacrificial slaughter for it on the Day of Resurrection.

(Hisn al-Muslim 230)

" اللَّهُمَّ إِنِّي اتَّخَذْتُ عِنْدَكَ عَهْدًا لَنْ تُخْلِفَنِيهِ فَأَيُّمَا مُؤْمِنٍ سَبَبْتُهُ أَوْ جَلَدْتُهُ فَاجْعَلْ ذَلِكَ كَفَّارَةً لَهُ يَوْمَ الْقِيَامَةِ " .

I have held covenant with Thee which Thou wouldst not break, so for any believer whom I curse or beat, make that an expiation on the Day of Resurrection.
(Sahih Muslim 2601 g)



Caption